# មាតិកា

Technical of Designing for Autodesk Revit Structure

# I. សេចក្តីណែនាំ:

## 1. របៀបបង្កើត Project តាម Revit Structure:




➢ នៅលើផ្ទាំងរបស់ Project ជ្រើសរើសយក New

ចំពោះ Families វិញលុះត្រាតែយើងមាន Family template file ទើបអាចដំណើរការគំរោងក្នុង Autodesk Revit Structure បាន។ File វាជាប្រភេទ ( *.rft) ។

## 2. ក្ដអរដោនេ និង នីវ៉ូ:

នៅក្នុងការបង្កើត វីរចនាប្លង់ចាំបាច់ត្រូវបង្កើតអោយមានក្ដអរដោនេ និង នីវ៉ូរបស់វា។ ជាទូទៅនៅពេលបញ្ចូលកម្មវិធី Autodesk Revit structure 2010 តែងតែជួបបញ្ហា Errors នៅចុងបញ្ចប់នៃការ Install ព្រោះវាត្រូវការ File មួយចំនួនដែលខ្វះខាត ដោយសារតែ Software មិនមាន License ហើយវាក៏ជះឥទ្ធិពលទៅលើការបង្កើត ក្ដអរដោនេ និង នីវ៉ូមិនប្រក្រតី ដូចច្នេះដើម្បីដោះស្រាយ យើងត្រូវចំលង File ( Structural Analysis-DefaultMetric.rte )ដាក់នៅទីតាំងមួយ ( C:\ProgramData\Autodesk\RST 2010\Metric Templates\ ) រួចចូលក្នុង File (menu) ចុចលើ Option → File location → Browse ( Defaults templates) ធ្វើការបើក File ដែលយើងបានចំលងនោះ ហើយ OK ។

## A. ការបង្កើតក្ដូអរដោនេ និង នីវ៉ូ:

Click លើ Home ( Ribbon ) → Datum → Grid

Click ចំនុចទី 1 ទៅចំនុចទី 2 តាមទិសដេក យើងបាន Axis

Click ចំនុចទី 1 ទៅចំនុចទី 2 តាមទិសឈរ យើងបាន Ordinate




Click លើ Home ( Ribbon ) → Datum → Level

មុននឹងធ្វើការបង្កើត Level យើងត្រូវបង្ហាញគំហើញជាប្លង់ឈរសិន រឺ Elevation

Click ចំនុចទី 1 ទៅចំនុចទី 2 តាមទិសដេក



## 3. ការយល់ដឹងទូទៅនៅក្នុង Home (Menu):




### A. របៀបក្នុងការបញ្ចូលគ្រឿងបង្គុំចូលក្នុង Project:

ជាទូទៅនៅក្នុងកម្មវិធី Autodesk Revit Structure ខុសប្លែកពីកម្មវិធីដទៃទៀត ព្រោះដើម្បីធ្វើការងារ Design ឬង់មួយបានលុះត្រាតែត្រូវបញ្ចូលនៅ Object Model តាមមុខងាររបស់វារៀងៗខ្លួនដូចបានបង្ហាញនៅខាងក្រោមនេះ។

#### i. ធ្នឹម (Beam):

របៀបក្នុងការបញ្ចូល Model Object របស់ធ្នឹមចូលក្នុងគំរោងយើងត្រូវ:

- នៅក្នុង Structure ( Tab ) ជ្រើសយក Beam
- បង្ហាញផ្ទាំងដូចខាងក្រោមហើយជ្រើសយកពាក្យ Yes




- Click លើ Object ( Double C-Channel.rfa )




- កំណត់យកមុខកាត់ និង ទំហំរបស់ Steel ក្នុងផ្ទាំង Specify Types




របៀបក្នុងការបញ្ចូល Model Object របស់ធ្នឹមចូលក្នុងគំរោងយើងត្រូវៈ

- នៅក្នុង Structure ( Tab ) ជ្រើសយក Column
- បង្ហាញផ្ទាំងដូចខាងក្រោមហើយជ្រើសយកពាក្យ Yes




- Click លើ Object ( HP-Bearing pile-column.rfa )



➢ កំណត់យកមុខកាត់ និង ទំហំរបស់ Steel ក្នុងផ្ទាំង Specific Type




| Type | W | A | d | tw | bf | tf | k |
|---|---|---|---|---|---|---|---|
| | (all) | (all) | (all) | (all) | (all) | (all) | (all) |
| HP360X174 | 1.710 | 0.022 m² | 361.0 | 20.4 | 378.0 | 20.4 | 38.0 |
| HP360X152 | 1.490 | 0.019 m² | 356.0 | 17.9 | 376.0 | 17.9 | 35.0 |
| HP360X132 | 1.300 | 0.017 m² | 351.0 | 15.6 | 373.0 | 15.6 | 33.0 |
| HP360X108 | 1.070 | 0.014 m² | 346.0 | 12.8 | 370.0 | 12.8 | 30.0 |
| HP310X125 | 1.230 | 0.016 m² | 312.0 | 17.4 | 312.0 | 17.4 | 35.0 |
| HP310X110 | 1.080 | 0.014 m² | 308.0 | 15.4 | 310.0 | 15.4 | 33.0 |
| HP310X93 | 0.919 | 0.012 m² | 303.0 | 13.1 | 308.0 | 13.1 | 30.0 |
| HP310X79 | 0.773 | 0.010 m² | 299.0 | 11.0 | 306.0 | 11.0 | 28.0 |
| HP250X85 | 0.832 | 0.011 m² | 254.0 | 14.4 | 260.0 | 14.4 | 32.0 |
| HP250X62 | 0.615 | 0.008 m² | 246.0 | 10.5 | 256.0 | 10.5 | 28.0 |
| HP200X53 | 0.525 | 0.007 m² | 204.0 | 11.3 | 207.0 | 11.3 | 29.0 |

## iii. គ្រឹះរាក់ (Isolated Foundation):

➢ នៅក្នុង Foundation ( Tab ) ជ្រើសយក Isolated

➢ ធ្វើដូចលំនាំខាងលើ ក្រោយមកយើងនឹងបានរូបដូចខាងក្រោមៈ



## iv. ការណែនាំទូទៅទាក់ទងនឹង Symbol ក្នុង Home (Menu):



- **Beam** : សំរាប់បញ្ចូល Object របស់ធ្នឹម ( RC Beam, Steel, wood… )
- **Wall** : សំរាប់បញ្ចូល Object របស់ជញ្ជាំង ( RC Wall, Masonry, wood… )
- **Column** : ចែកចេញជា ២ គឺ Structural Column និង Architectural Column សំរាប់បញ្ចូល Object របស់សសរ ( RC Column, Steel, wood… )
- **Floor** : សំរាប់កំណត់លក្ខណៈរបស់ជាន់ ដូចជាការកំណត់ ចំណោត រឺ ជំរាលជាដើម
- **Truss** : សំរាប់កំណត់គ្រឿងបង្គុំជន្ទល់ខ្វែង ច្រើនកើតមានលើ Structure ដែក។
- **Brace** : សំរាប់បញ្ចូលក្នុងគ្រឿងបង្គុំរណប ភាគច្រើនតែងភ្ជាប់ជាមួយធ្នឹម រឺ សសរ។
- **Beam system**: សំរាប់បង្កើតប្រព័ន្ធធ្នឹម ។
- **Isolated** : សំរាប់បញ្ចូលនូវ Object ដែលជាប្រភេទគ្រឹះ ។
- **Wall ( Retaining) :** សំរាប់បញ្ចូលនូវប្រភេទជញ្ជាំងទប់ដី។
- **Slab** : សំរាប់បង្កើតកំរាលខ័ណ្ឌ
- **Railing** : សំរាប់បញ្ចូលនូវប្រភេទបង្កាន់ដៃផ្សេងៗ
- **Ramp** : សំរាប់បង្កើតចំណោត រឺ ផ្លូវឡើងចូលជាដើម
- **Stair** : សំរាប់បង្កើតជណ្ដើរគ្រប់ប្រភេទ ទាំងជណ្ដើរកោង, Spiral, ជណ្ដើរត្រង់…
- **Component** : សំរាប់បញ្ចូល **Object** ដទៃទៀតមានដូចជា: ជណ្ដើរយន្ត, គ្រឿងសង្ហារឹម, បរិក្ខារបន្ទប់ទឹក, បន្ទប់ដេក…។
- **Model Text** : សំរាប់សរសេរអក្សរលើប្លង់, កំណត់ប្រភេទអក្សរ…
- **Model Line** : សំរាប់កំណត់ប្រភេទបន្ទាត់គំរូរដើម្បីសាងសង់គ្រឿងបង្គុំ។
- **Level** : សំរាប់កំណត់កំពស់ និង ចំនួនជាន់របស់អគារ
- **Grid** : សំរាប់កំណត់កូអរដោនេ X និង Y ។
- **Show** : សំរាប់លាក់ រឺ បង្ហាញខ្សែក្នុងប្លង់ ។

## v. របៀបបញ្ចូល Object ទៅក្នុងបណ្ណាល័យរបស់ Revit Structure:

ដើម្បីបញ្ចូល Object Model បន្ថែមទៅក្នុង Library របស់ Revit យើងត្រូវ:

- Insert ( menu )
- Load from Library ( Tab )
- Load family
- Insert Meeting Table from Directory

## vi. របៀបក្នុងការបង្កើត Model Line:

- ក្នុង Home – Model – ជ្រើសយកពាក្យ Model Line




- ក្នុង Draw ជ្រើសយកប្រភេទ Line ដែលត្រូវយកមកគូរ




## vii. របៀបក្នុងការបញ្ចូលធ្នឹម និង សសរទៅក្នុង Model Line:

- Insert សសរ ទៅតាមទីតាំងដែលត្រូវដាក់
- ភ្ជាប់ធ្នឹមពីសសរមួយទៅសសរមួយទៀតតាមរយៈអ័ក្សសសរ



## viii. របៀបក្នុងការបញ្ចូលគ្រឿងបង្គុំទៅក្នុងក្ងួអរដោនេ:

ក្រោយពីបានបង្កើតក្ងួអរដោនេ និង នីវ៉ូ ដែលមានប្រវែង និង កំពស់ច្បាស់លាស់ យើងអាចបញ្ចូលគ្រឿងបង្គុំជាច្រើនចូលតាមទីតាំងរបស់វានីមួយៗ ដូចជា សសរ ធ្នឹម ជញ្ជាំង កំរាលខណ្ឌ គ្រឹះ ...វិស័យភារៈ និង ឧបករណ៍ផ្សេងៗ ដូចជា តុ ទូ កៅអី ទ្វារ បង្អួច អំពូលភ្លើង...។

### A. វិធីសាស្ត្រងាយៗ និង រហ័សសំរាប់បញ្ចូលធ្នឹម, សសរជាដើមទៅក្នុងក្ងួអរដោនេ:

ករណីបើ សសរ និង ធ្នឹមមានប្រភេទ និង ទំហំដូចគ្នាយើងអាចធ្វើការបញ្ចូលបានម្ដងទាំងអស់ទៅក្នុងក្ងួអរដោនេតែម្ដង

**សសរ:**

- Click លើ Column ( structure )
- ជ្រើសរើសមុខកាត់សសរ
- Click លើ On Grids
- ប្ដូរកំពស់ទៅតាមកំពស់ជាន់និងប្រភេទទីតាំងសសរ Depth រឺ Height




- Select លើ Grid ទាំងអស់ រួចចុចលើ ✓ Finish Selection



**ធ្នឹម:**

- Click លើ Beam
- **ប្តូរមុខកាត់ធ្នឹម**
- Click លើ On Grids
- Select លើ Grid **ទាំងអស់ រួចចុចលើ** ✓ Finish Selection



## 4. ការយល់ដឹងទូទៅនៅក្នុង Insert ( Menu )




| ល.រ | រូបសញ្ញាតំណាង Icons | ឈ្មោះ Name | ការប្រើប្រាស់ Using |
|---|---|---|---|
| 1 | Link Revit | Link Revit | មានតួនាទីសំរាប់បញ្ចូល Project បន្ថែមជា File កម្មវិធី Revit ចូលក្នុងគំរោងដែលកំពុងធ្វើការ |
| 2 | Link CAD | Link CAD | មានតួនាទីសំរាប់បញ្ចូល Project បន្ថែមជា File កម្មវិធី AutoCad ចូលក្នុងគំរោងដែលកំពុងធ្វើការ |
| 3 | DWF Markup | DWF Markup | សំរាប់បញ្ចូលគំរោងជា File DWF ទៅក្នុងគំរោងកំពុងមានតែមិនអាចធ្វើការកែសំរួលបានទេ |
| 4 | Decal Types | Decal Types | សំរាប់បញ្ចូលរូបភាពទៅក្នុងផ្ទៃអគារ |
| 5 | Manage Links | Manage Links | ជួយសំរួលដល់ការទំនាក់ទំនងរវាង CAD File, DWF Markup, Revit file |
| 6 | Import CAD | Import CAD | មានតួនាទីសំរាប់បញ្ចូល Project បន្ថែមជា File កម្មវិធី AutoCad ជាមួយ Data, Vector... ចូលក្នុងគំរោងដែលកំពុងធ្វើការ |
| 7 | Insert from File | Insert from File | មានទំនាក់ទំនងទៅនឹងការបញ្ចូល File Revit បន្ថែមចូលក្នុងគំរោងមានលក្ខណៈ 2D, កាលវិភាគ, ប្លង់លំអិត |
| 8 | Image | Image | សំរាប់បញ្ចូលរូបភាពទៅក្នុងប្លង់ |

| | | | |
|---|---|---|---|
| 9 | Manage Images | Manage Image | សំរាប់ធ្វើការគ្រប់គ្រងរូបភាពដែលមាន |
| 10 | Load mily | Load Family | សំរាប់បញ្ចូល BIM Object ទៅក្នុងគំរោងដែលមាន |
| 11 | Load as Group | Load as Group | សំរាប់បញ្ចូល BIM Object ទៅក្នុងគំរោងដែលមានជាក្រុម |

## 5. ការយល់ដឹងទូទៅនៅក្នុង Analyze ( Menu ):

នៅក្នុងគំរោងសាងសង់អ្វីមួយចាំបាច់ត្រូវកំណត់នូវប្រភេទបន្ទុកផ្សេងៗដែលមានអំពើទៅលើគ្រឿងបង្គុំអគារ ហើយបន្ទុកទាំងនោះអាចជាបន្ទុកថេរ និង បន្ទុកអថេរ ( Dead Load or Live Load) ក្រៅពីនេះនៅមានបន្ទុកមួយចំនួនទៀតដូចជា: បន្ទុកខ្យល់, បន្ទុកព្រិលធ្លាក់, បន្ទុកគ្រោះថ្នាក់, បន្ទុកសីតុណ្ហភាព, បន្ទុក Seismic ជាដើម។ កម្មវិធី Autodesk Revit Structure 2010 វាមិនមែនជាកម្មវិធីគណនារកសរសៃដែកក៏ពិតមែន តែវាអាចអោយយើងធ្វើការកំនត់នូវបន្ទុកដើម្បីរកនៅកំលាំងក្នុងរបស់អគារដូចជា ម៉ូម៉ង់, កំលាំងកាត់ទទឹង, កំលាំងស្របអ័ក្សបារ...មិនតែប៉ុណ្ណោះយើងអាចធ្វើការតភ្ជាប់ទៅកាន់កម្មវិធី Autodesk Robot Structural Analysis 2010 ដើម្បីធ្វើការគណនារកសរសៃដែក និង សិក្សាលំអិតទៅលើកំលាំង និង ជាតុភូតផ្សេងៗដែលមានអំពើមកលើគ្រឿងបង្គុំអាគារទាំងមូល។ ខាងក្រោមនេះគឺជាតារាងដែលពន្យល់នូវការប្រើប្រាស់ខ្លះដោយសង្ខេបដែលមាននៅក្នុង Analyze Menu

Loads | Load Cases | Load Combinations | Boundary Conditions | Analytical Adjust | Analytical Reset | Check Supports | Consistency Checks
Loads | Boundary Conditions | Analytical Model Tools

| ល.រ | រូបសញ្ញាតំណាង Icons | ឈ្មោះ Name | ការប្រើប្រាស់ Using |
|---|---|---|---|
| 1 | Loads | Loads | សំរាប់កំណត់បន្ទុកផ្សេងៗលើគ្រឿងបង្គុំ |
| 2 | Load Cases | Load Cases | សំរាប់ធ្វើការបន្ថែម និង កែច្នៃប្រភេទបន្ទុក |

| | | | |
|---|---|---|---|
| 3 | Load Combinations | Load Combinations | សំរាប់បន្សំបន្ទុកចូលគ្នា |
| 4 | Boundary Conditions | Boundary Conditions | សំរាប់កំនត់ព្រំដែននៃការដាក់បន្ទុកលើគ្រឿងបង្គុំ |
| 5 | Analytical Adjust | Analytical Adjust | ធ្វើការកែតំរូវ និង វិភាគនៅសម្ព័ន្ធរបស់គ្រឿងបង្គុំ |
| 6 | Analytical Reset | Analytical Reset | ធ្វើការវិភាគសារឡើងវិញនៅសម្ព័ន្ធរបស់គ្រឿងបង្គុំ |
| 7 | Check Supports | Check Supports | សំរាប់ធ្វើការត្រួតពិនិត្យលើទំរ |
| 8 | Consistency Checks | Consistency Checks | ធ្វើការកែតំរូវសម្ព័ន្ធរបស់គ្រឿងបង្គុំដែលមានទំនាក់ទំនងទៅនឹងធាតុនៃតំណរ |
| 9 | Point Load | Point Load | បញ្ចូលនូវបន្ទុកចំនុចលើទីតាំងដែលបានកំណត់លើគ្រឿងបង្គុំ |
| 10 | Line Load | Line Load | បញ្ចូលនូវបន្ទុករាយស្មើនៅទីតាំងដែលបានកំណត់លើគ្រឿងបង្គុំ |
| 11 | Area Load | Area Load | បញ្ចូលនូវបន្ទុកជាផ្ទៃនៅទីតាំងដែលបានកំណត់លើគ្រឿងបង្គុំ |
| 12 | Hosted Point Load | Hosted Point Load | សំរាប់កំណត់នូវបន្ទុកចំណុចលើគ្រឿងបង្គុំ |
| 13 | Hosted Line Load | Hosted Line Load | កំណត់នូវបន្ទុករាយស្មើលើគ្រឿងបង្គុំ |
| 14 | Hosted Area Load | Hosted Area Load | កំណត់នូវបន្ទុកជាផ្ទៃលើគ្រឿងបង្គុំ |

## 6. ការយល់ដឹងទូទៅនៅក្នុង Architect and Site ( Menu ):

យើងដឹងហើយថា Architect គឺសំដៅទៅលើការងារស្ថាបត្យកម្ម គឺភាពច្នៃប្រឌិត និង គំនិតនៃការបង្កើតថ្មីៗ ហើយ Site គឺមានន័យថា ការដ្ឋាន ដែលជាទីតាំងមួយសំរាប់ធ្វើការសាងសង់។ មុខងារនៅក្នុង Architect and Site អាចធ្វើការបង្កើតនូវគំរូថ្មី ឬ វត្ថុថ្មីតាមរយៈ Mass, បង្កើតផ្ទៃ Topographic ដូចជាក់ស្ដែងនៅឯការដ្ឋានពិត។ មិនតែប៉ុណ្ណោះយើងអាចធ្វើការបន្ថែមនូវគ្រឿងផ្សំផ្សេងៗនៃអគាររបស់យើងដូចជា ទ្វារ, បង្អួច, ដំបូល, គ្រឿងសមាសភាពផ្សេងៗរបស់ការដ្ឋាន។ ដែលទាំងនេះវាអាចជួយអោយអគាររបស់យើងដែលបានរចនាហើយមានភាពទាក់ទាញមួយកំរិតទៀត




| ល.រ | រូបសញ្ញាតំណាង Icons | ឈ្មោះ Name | ការប្រើប្រាស់ Using |
|---|---|---|---|
| 1 | In-Place Mass | In-Place Mass | សំរាប់ធ្វើការបង្កើត Mass ថ្មី |
| 2 | Show Mass | Show Mass | សំរាប់បង្ហាញ ឬ លាក់ Mass ក្នុង Project |
| 3 | Place Mass | Place Mass | សំរាប់បញ្ចូល Mass ពីក្រៅមកក្នុង Project |
| 4 | Model by Face | Model by Face | សំរាប់បំលែងផ្ទៃ Mass ធ្វើជាជញ្ជាំង, ដំបូល, កំរាលខ័ណ្ឌ |
| 5 | Door | Door | សំរាប់ធ្វើការចុះ ឬ បំពាក់ទ្វារ |
| 6 | Window | Window | សំរាប់ធ្វើការចុះ ឬ បំពាក់បង្អួច |
| 7 | Roof | Roof | សំរាប់បង្កើតដំបូល |

| | | | |
|---|---|---|---|
| 8 | Curtain Grid | Curtain Grid | សំរាប់បង្កើត Segment នៅក្នុង Object Mass ( បន្ទាត់ Grid Line ) |
| 9 | Mullion | Mullion | សំរាប់បង្កើត Segment នៅក្នុង Object Mass ( ចង្រឹង, រណាំង ) |
| 10 | Toposurface | Toposurface | សំរាប់បង្កើតផ្ទៃ Topo នៅក្នុង Project |
| 11 | Site Component | Site Component | សំរាប់បញ្ចូលបន្ថែមនូវគ្រឿងផ្សំ និង ឧបករណ៏ផ្សេងៗមកក្នុងការដ្ឋាន |
| 12 | Parking Component | Parking Component | សំរាប់បញ្ចូលបន្ថែមនៅគ្រឿងផ្សំ និង ឧបករណ៏ផ្សេងៗសំរាប់ចំណតរ ឺ ឧទ្យាន |
| 13 | Building Pad | Building Pad | កំនត់ផ្ទៃបាតរ ឺ ទ្រនាប់បាតរបស់អគារ លើផ្ទៃ Topographic |
| 14 | Split Surface | Split Surface | សំរាប់ច្រៀកយកផ្ទៃ |
| 15 | Subregion | Subregion | សំរាប់បង្កើតតំបន់ រ ឺ ផ្ទៃបន្ថែម |
| 16 | Property Line | Property Line | សំរាប់ប្ដូរលក្ខណៈបន្ទាត់ក្នុងប្លង់ |
| 17 | Graded Region | Graded Region | សំរាប់ធ្វើការកែប្រែផ្ទៃ Topo ដើម្បីបង្ហាញពីការផ្លាស់ប្ដូរនៃដំនើរការសាងសង់ |
| 18 | 50 Label Contours | Label Contours | សំរាប់កំណត់ឈ្មោះខ្សែកុងទួ |

## 7. ការយល់ដឹងទូទៅនៅក្នុង View ( Menu ):

View ( menu ) មានតួនាទីសំខាន់ក្នុងការបង្ហាញ និង បង្កើតនូវគំហើញទាំងឡាយដែលមាននៅក្នុងប្លង់។ គំហើញជាប្លង់បាត, ប្លង់បញ្ឈរ រឺ គំហើញជាហោជាង សុទ្ធតែមានសារៈសំខាន់ដែលត្រូវតែមានក្នុងប្លង់ខានមិនបាន។ Autodesk Revit Structure 2010 អាចជួយសំរួលដល់ការងារទាំងនេះបានយ៉ាងច្រើន និង រហ័សថែមទៀត ព្រោះរាល់ការ Design អ្វីមួយនៅក្នុង Project សុទ្ធតែត្រូវបាន Set ចូលក្នុងគំហើញទាំងអស់មិនថា គំហើញពីលើ, ក្រោម, ជើង, លិច, ត្បូង, កើត រឺ គំហើញជា 3D នោះទេ គឺវាបានបំពេញទិន្នន័យតាមទិសរបស់វានីមួយៗដោយស្វ័យប្រវត្តិ ហើយលើសពីនេះ

យើងក៏អាចច្រៀកប្លង់ទាំង 2D និង 3D ដើម្បីពន្យល់លំអិតបន្ថែមពីប្លង់ថែមទៀត។







| ល.រ | រូបសញ្ញាតំណាង Icons | ឈ្មោះ Name | ការប្រើប្រាស់ Using |
|---|---|---|---|
| 1 | View Properties | View | សំរាប់បង្ហាញ និង កែប្រែទិន្នន័យរបស់ Object |
| 2 | View Templates | View Templates | Applies, Edit, Create the standard Setting to View |
| 3 | Visibility/Graphics | Visibility/Graphics | សំរាប់បើក រី លាក់សមាសភាគ ដែលមានក្នុងប្លង់ |
| 4 | Filters | Filters | បង្កើត Filters អាចអោយយើងកែប្រែទៅសមាធាតុមួយនៅក្នុងប្លង់ |
| 5 | Thin Lines | Thin Lines | សំរាប់បង្ហាញប្រភេទបន្ទាត់ទាំងអស់មកជាបន្ទាត់ដិត ហើយ ស្តើង |
| 6 | 3D View | 3D View | សំរាប់បង្ហាញគំហើញ 3D |
| 7 | Walkthrough | Walkthrough | សំរាប់កំនត់ការដើរក្នុងប្លង់ រី គំរោង |

| | | | |
|---|---|---|---|
| 8 | Elevation | Elevation | សំរាប់បង្ហាញគំហើញជាប្លង់បញ្ឈរ |
| 9 | Section | Section | សំរាប់បង្កើតប្លង់ពំនុះកាត់ |
| 10 | Drafting View | Drafting View | សំរាប់បង្ហាញប្លង់ពង្រាង |
| 11 | Callout | Callout | សំរាប់ពុះច្រៀកយកប្លង់ចេញមកក្រៅ |
| 12 | Plan Views | Plan Views | សំរាប់បង្កើតគំហើញតាមផ្នែក រឺ តាមកន្លែងដែលកំណត់ |
| 13 | Legends | Legends | បង្ហាញនិងបង្កើតសញ្ញាសំគាល់ក្នុង គំរោងរាល់ដំណាក់កាលផ្សេងៗក្នុងប្លង់ |
| 14 | Schedules | Schedules | កំណត់កាលវិភាគ តារាងទិន្នន័យរបស់គំរោង |
| 15 | Activate | Activate | បើកដំណើរការកែប្រែប្លង់ក្នុង Sheetបាន |
| 16 | New Sheet | New Sheet | សំរាប់បង្កើត Sheet |
| 17 | View | View | សំរាប់បញ្ចូលប្លង់ទៅក្នុង Sheet |
| 18 | Title Block | Title Block | ដាក់ឈ្មោះ...អោយ Sheet |
| 20 | Matchline | Matchline | សំរាប់កាត់យកចេញពំនុះប្លង់ ដែលមិនត្រូវបង្ហាញ |
| 21 | Switch Windows | Switch Windows | Switch Windows |
| 22 | Close Hidden | Close Hidden | បិតដោយលាក់ Windows ដែលកំពុងដំណើរការសិន |
| 23 | Replicate | Replicate | បើកបន្ថែម Windows ដែលមាន ស្រាប់មួយទៀត |
| 24 | Cascade | Cascade | រៀបចំ Windows ក្នុងកម្មវិធីជាស៊េរី |

| | | | |
|---|---|---|---|
| 25 | Tile | Tile | រៀបចំ Windows ក្នុងកម្មវិធីជាប្រអប់ដាច់ដោយឡែកពីគ្នា |
| 26 | User Interface | User Interface | ត្រួតពិនិត្យទៅលើសមាសភាគផ្សេងៗរបស់អ្នកប្រើ, រួចបញ្ចូលទាំង Status Bar និង Project Broswer |
| 27 | Scope Box | Scope Box | សំរាប់កំណត់ព្រំដែននៃប្លង់ |
| 28 | Camera | Camera | ដាក់កាមេរ៉ា សំរាប់គំហើញតាមផ្នែក |

## 8. Annotate:







| ល.រ | រូបសញ្ញាតំណាង Icons | ឈ្មោះ Name | ការប្រើប្រាស់ Using |
|---|---|---|---|
| 1 | Aligned | Aligned | សំរាប់វាស់ប្រវែងបន្ទាត់បានគ្រប់ទិស |
| 2 | Linear | Linear | សំរាប់វាស់ប្រវែងបន្ទាត់បាន ៤ ទិស |
| 3 | Angular | Angular | សំរាប់វាស់មុំ |
| 4 | Radial | Radial | សំរាប់វាស់កាំរង្វង់ |
| 5 | Arc Length | Arc Length | ប្រើសំរាប់វាស់ប្រវែងធ្នូ |
| 6 | Spot Elevation | Spot Elevation | កំណត់នីវ៉ូក្នុងប្លង់ |

| | | | |
|---|---|---|---|
| 7 | Spot Coordinate | Spot Coordinate | កំណត់កូអរដោនេក្នុងប្លង់ |
| 8 | Spot Slope | Spot Slope | សំរាប់កំណត់ Slobe រឺ ជំរាល |
| 9 | Detail Line | Detail Line | សំរាប់បង្កើតបន្ទាត់ដោយមានប្រវែងច្បាស់លាស់ |
| 10 | Component | Component | សំរាប់បញ្ចូលសមាភាគគ្រឿងបង្គុំបន្ថែម |
| 11 | Detail Group | Detail Group | សំរាប់បញ្ចូលគ្រឿងបង្គុំជាក្រុមតែមួយ |
| 12 | Filled Region | Filled Region | សំរាប់បំពេញផ្ទៃផ្សេងៗនៅកន្លែងកំនត់ |
| 13 | Masking Region | Masking Region | ដោះបំពេញផ្ទៃផ្សេងៗនៅកន្លែងកំនត់ |
| 14 | Revision Cloud | Revision Cloud | សំរាប់គូរបង្ហាញសញ្ញាសំគាល់រាងជាពពក |
| 15 | Text | Text | សំរាប់បញ្ចូលតួអក្សរទៅក្នុងប្លង់ |
| 16 | ABC Spelling | ABC spelling | សំរាប់កែសំរួលអក្ខរាវិរុទ្ធ |
| 17 | Beam Annotations | Beam Annotations | Beam Annotations |
| 18 | Tag | Tag | សំរាប់បង្ហាញទិន្នន័យរបស់គ្រឿងបង្គុំម្តង១ |
| 19 | Tag All | Tag All | បង្ហាញទិន្នន័យរបស់គ្រឿងបង្គុំម្តងទាំងអស់ |
| 20 | Symbol | Symbol | សំរាប់ដាក់សញ្ញាសំគាល់ |

## 9. ការសិក្សាលក្ខណៈទូទៅដែលមានក្នុង Modify ( Menu )



| | |
|---|---|
| Align | សំរាប់ធ្វើការតំរែតំរង់នៅ Object ដែលនៅខុសជួរ.... |
| Trim | មានតួនាទីសំរាប់តំរឹម Object អោយចូលគ្នា |
| Extend | មានតួនាទីសំរាប់ពន្លូត Object អោយជាប់គ្នា |
| Split | ប្រើសំរាប់កាត់ជញ្ជាំង រឺ បន្ទាត់នៅលើចំនុចដែលយើងបាន Select |
| Offset | សំរាប់អោយ Object លយចេញមកក្រៅ រឺ ទៅក្នុងដោយចំងាយច្បាស់លាស់ |
| Measure | មានតួនាទីសំរាប់វាស់ខ្នាតអោយ Object |
| Element ID | ផ្តល់ពត៌មានអំពី IDs នៃ Object ដែលយើងមានក្រោយពី Select |
| Report Coordinates | វាធ្វើការបង្ហាញតំលៃកូអរដោនេនៃទីតាំងរបស់ Object |
| Wall Joins | ប្រើសំរាប់ភ្ជាប់ប្រភេទជញ្ជាំងបញ្ចូលគ្នា |
| Beam/Column Joins | ប្រើសំរាប់ភ្ជាប់តំណររវាងធ្នឹម និង សសរ អោយចូលសាច់តែមួយ |
| Cut | ប្រើសំរាប់កាត់រឺចុះប្រហោងលើ Object ( ប្រហោងទ្វារ, បង្អួច...) |
| Join | ប្រើសំរាប់ភ្ជាប់ រឺ ធ្វើតំណរនៅ Object 2 បញ្ចូលគ្នា |
| Coping | ប្រើសំរាប់ថតចំលង Object ថ្មីមួយទៀត |
| Demolish | វាធ្វើការបង្ហាញជាសញ្ញាក្រោយពីយើងផ្លាស់ប្តូរនៅ Object ចេញ |
| Linework | កែប្រែប្រភេទបន្ទាត់ |

## 10. ការសិក្សាពីគំហើញ និង ការបំលែងប្លង់អោយទៅជាប្លង់ពិតៈ

ជាទូទៅក្នុងការធ្វើការងារចាំបាច់ត្រូវការប្រើប្រាស់នៅគំហើញផ្សេងៗដើម្បីងាយស្រួលក្នុងការ Design លើប្លង់ ដែលគំហើញនៅក្នុងកម្មវិធី Autodesk Revit Structure នេះមានគំហើញគ្រប់ជ្រុងទាំងអស់បូករួមទាំងគំហើញក្នុងគ្រឿងបង្គុំថែមទៀត។



### A. ការបង្ហាញពីគំហើញតាមរយៈ Project Browser

ខាងក្រោមនេះជាគំរូនៃផ្ទះវីឡាមួយជាន់ដែលបង្ហាញពីគំហើញតាមរយៈប្លង់បាតក្នុង Project Browser ដោយយើងគ្រាន់តែចូលក្នុង View(all) – Structural Plans – (Double click) **Level 1**



ដើម្បីបង្ហាញជាប្លង់ក្នុងលំហវិញគឺចូលក្នុង View(all) – 3D Views – (Double click) **{3D}**



**B.** <u>**ការបង្ហាញពីគំហើញតាមរយៈ** View Menu:</u>



## C. ការបំលែងប្លង់ក្នុងគំរោងអោយទៅជាប្លង់ពិតៈ

Click លើរូបតំណាងដើម្បីធ្វើការ Render 




Click លើពាក្យថា Render

**Note:** Quality Setting សំរាប់កំណត់គុណភាពរូបភាពចាប់ពីកំរិត Draft រហូតដល់ Best ។

Lighting សំរាប់កំណត់ពន្លឺក្នុង និង ក្រៅអគារ

Background សំរាប់ប្តូរពណ៌ផ្ទៃនៅពីក្រោយប្លង់

Adjust Exposure កំណត់ពណ៌ពន្លឺ, ដាក់ស្រមោល..

Export សំរាប់នាំចេញរូបភាពទៅក្រៅដោយបំលែងទៅជា File ( Jpeg, bmp, gif… )









## II. វិធីសាស្ត្រក្នុងការប្រើប្រាស់ Material:

នៅក្នុងកម្មវិធី Autodesk Revit Structure 2010 ការប្រើប្រាស់ Material គឺមានភាពងាយស្រួលក្នុងការកំណត់ប្រភេទរូបធាតុផ្សេងចូលក្នុងគ្រឿងបង្គុំមានដូចជា បេតុង, ថ្មម៉ាប, ទឹក, កញ្ចក់, ការ៉ូ, ក្រណាត់, ដែក, សំណ, ក្រដាស....។

Click on Manage ( Menu )

Click on Material



**1.** នៅក្នុង Block material នេះរាល់ Object ទាំងឡាយដែលមាននៅក្នុងប្លង់ត្រូវបានបង្ហាញនៅក្នុងនេះទៅតាមប្រភេទនីមួយៗរបស់វា ដូចជា ជញ្ជាំង, សសរ, គ្រឹះ, ធ្នឹម, បង្អួចកញ្ចក់, ដំបូលក្បឿង, ទ្វារឈើ....។ ដូចនេះដើម្បីប្ដូរប្រភេទ Material របស់វាបានលុះត្រាតែយើងជ្រើសរើសយក Object ណាមួយដែលចង់ប្ដូរ។ ម្យ៉ាងវិញទៀតប្រសិនបើយើងចង់ប្ដូរឈ្មោះ, លុប, រឺចង់បង្កើតនៅប្រភេទ Material ថ្មី យើងត្រូវ Select នេ

- Symbol ទី ១ សំរាប់បង្កើត Material ថ្មី
- Symbol ទី ២ សំរាប់ប្ដូរឈ្មោះ Material ដែលមានស្រាប់
- Symbol ទី ៣ សំរាប់លុប Material ដែលមាន

**2.** **Graphic ( Tab )** មានតួនាទីសំរាប់កំណត់ពណ៌របស់ Object ដែលនៅខាងឆ្វេង (Block Material ) ដោយយើងគ្រាន់តែ Select យកប្រភេទគ្រឿងបង្គុំណាមួយហើយ Click ត្រង់ពណ៌ដែលមាននៅក្នុង Shading ដើម្បីប្ដូរ។ ចំពោះ **Render Appearance (Tab)** វិញគឺសំរាប់កែកុននូវរូបធាតុ រឺ ទំរង់ផ្សេងពីនេះដូចបង្ហាញនៅខាងក្រោមៈ



Click on Replace ដើម្បីជ្រើសរើស Material ដ៏ទៃទៀតពេលនោះវានឹងបង្ហាញផ្ទាំងថ្មីមួយទៀតដូចខាងក្រោមៈ




ជ្រើសរើស Material ណាមួយដែលចង់ប្តូរ រួចចុច OK ប៊ូតុង ។

**ឧទាហរណ៍:** ខាងក្រោមនេះជាកូនបន្ទប់មួយដែលមានតែ បង្អួច, សសរ, ធ្នឹម, ជញ្ជាំង ដោយមិនទាន់បញ្ចូលនូវ Material បានគ្រប់គ្រាន់ឡើយ។

Material ដែលត្រូវបញ្ចូល

- សសរ ជ្រើសយក Concrete
- ធ្នឹម ជ្រើសយក Concrete
- បង្អួច ជ្រើសយក Glass
- ស៊ុមបង្អួច ជ្រើសយក Wood
- ជញ្ជាំង ជ្រើសយក Masonry



## ជំហ៊ានទី ១ ការប្តូរ Material របស់សសរ, ធ្នឹម:

1) Click on **Manage ( menu )**

2) ក្នុង Project Setting Tab ជ្រើសយក **Material**




ដើម្បីអោយក្លាយជាបេតុង ដោយយើងគ្រាន់តែចុចលើ Button **Replace**

4) វាបង្ហាញផ្ទាំង Render Appearance Library

5) ក្នុង Class ប្តូរវាទៅ Concrete ហើយជ្រើសរើសយក Concrete ដែលនៅទី ១ រួច OK






## ជំហានទី ២ ការប្តូរ Material របស់កញ្ចក់:

6) Click on **Glass** ហើយចុចលើ **Replace** Button ដើម្បីប្តូរប្រភេទកញ្ចក់

7) ក្នុង Class ដដែល ប្តូរទៅជា Glass ហើយជ្រើសយក Glass Amber



## ជំហានទី ៣ ការប្តូរ Material របស់ស៊ុមបង្អួច

8) Click on Window Frame ហើយ ចុចលើ **Replace Button**

9) ក្នុង Class ដដែលប្តូរទៅជា Wood




10) ជ្រើសរើស Wood Cherry Natural Medium Gloss

11) Click OK

## ជំហានទី ៣ ការប្តូរ Material របស់ជញ្ជាំង

12) Click on Default ហើយ ចុចលើ **Replace Button**

13) ក្នុង Class ប្តូរទៅជា Brick

14) ជ្រើសយក Brick Orange Uniform Running រួច OK

# III. Extension Manager

## 1. ការសិក្សាពី Grid Generator តាម Extension Manager

Grid និង Level មានតួនាទីសំខាន់សំរាប់កំណត់ទីតាំងឈរជើងរបស់សសរ, ធ្នឹម...យើងអាចដឹងពីទីតាំងរបស់គ្រឿងបង្គុំណាមួយអាស្រ័យនឹងកូអរដោនេ និង រយៈកំពស់របស់វា។ ចំពោះ Grid Generator វិញរឹតតែមានភាពងាយស្រួលជាងការកំនត់តាម Grid និង Level ដែលមានស្រាប់ក្នុង Autodesk Revit Structure 2010 ។ មានន័យថាយើងគ្រាន់តែកំណត់នូវកូអរដោនេ និង រយៈកំពស់របស់អគារ ហើយធ្វើការកំណត់នូវសសរ, ធ្នឹម, ជញ្ជាំង...បន្ថែម នោះវានឹងបង្ហាញចេញជាគ្រោងអគារទាំងមូលតែម្តង។

សូមមើលឧទាហរណ៍ដូចខាងក្រោមៈ

អាគារដែលមានកំពស់ 2 ជាន់



ដើម្បីអាចប្រើប្រាស់នូវ Grids Generator បានលុះត្រាតែយើងត្រូវ Set Up បន្ថែមនៅកម្មវិធី Autodesk Revit Structure Extension។ យើងអាចយកវាបានដោយមិនគិតថ្លៃក្នុង Web Site របស់ Autodesk។

ក្រោយពីបានបញ្ចូល Autodesk Revit Structure Extension រួចរាល់ហើយយើងត្រូវៈ

➤ <u>ជំហ៊ានទី ១</u>

1) ចុចលើ Add-in ( Menu )

2) ជ្រើសយក Extension Manager

3) ក្រោយមកផ្ទាំង Extension Manager បានបង្ហាញដូចខាងក្រោម




4) Double Click លើ Grids Generator

5) ផ្ទាំង Grids Generator បានបង្ហាញដូចខាងក្រោម




6) វាយបញ្ចូលនៅ ឈ្មោះ Level 1, Level 2, Level 3 ដែលមានក្នុង ទីតាំង Level

7) កំណត់កំពស់ជាន់តាម Level នីមួយៗ ដូចរូបខាងលើ

8) Click លើ Grids ដើម្បីកំណត់កូអរដោនេនៃអាគារ

9) សូមធ្វើការកំណត់ដូចរូបខាងក្រោម






- Number of Spacing គឺចំនួននៃគំលាតរបស់អ័ក្ស
- Numbering សំរាប់កំណត់ឈ្មោះរបស់កូអរដោនេ ដែលមានតំលៃជាលេខ, អក្សរ..
- Cartesian ដែលនៅក្នុង Grid Type សំរាប់កំនត់កូអរដោនេរាងជាជ្រុងស្របៗគ្នា
- Cyclindical សំរាប់កំនត់កូអរដោនេរាងស៊ីឡាំង

10) Click លើ Elements ដើម្បីកំណត់ប្រភេទគ្រឿងបង្គុំដែលត្រូវប្រើ

11) សូមធ្វើការកំណត់ដូចរូបខាងក្រោម


Grids generator
Levels
Grids
Elements
Columns
Generate columns
Family: Concrete Rectangular
Type: 450 x 600mm
Orientation
Orientation according to the grid
Rotate by 90 deg. in local system
Beams
Generate beams
Family: Concrete - Rectangular Beam
Type: 300 x 600mm
Walls
Generate walls
Family:
Type:
Levels:
Level 1
Level 2
Level 3
Spread footings
Generate spread footings
Level: Level 1
Family: Footing-Rectangular
Type: 1800 x 1200 x 450mm
Orientation
Orientation according to the grid
Rotate by 90 deg. in local system
Help
About
OK
Cancel

12) OK ជាការស្រេច



## 2. ការវិភាគលើគ្រឿងបង្គុំតាម Simulation ( Extension Manager )

នៅក្នុងកម្មវិធី Autodesk Revit Structure 2010 យើងអាចធ្វើការគណនារកកំលាំងមួយចំនួន ដែលមាននៅក្នុងគ្រឿងបង្គុំបានខ្លះដូចជា កំលាំងកាត់ទទឹង, ម៉ូម៉ង់, ភាពដាប, កំលាំងស្របអ័ក្ស របារជាដើម។ ខាងក្រោមនេះខ្ញុំបានដកស្រង់គ្រឿងបង្គុំមួយផ្នែកចេញមកសិក្សា



1) ក្រោយពីបានបញ្ចូលបន្ទុកគ្រប់ទីតាំងអស់ហើយ យើង Select ត្រង់ Frame ដែលត្រូវសិក្សាដូចរូបខាងលើ
2) Click on Add-in
3) ក្រោយពីចេញផ្ទាំង Extension Manager ហើយ
4) ជ្រើសយក Simulation
5) Double click លើ Frame




6) យើងអាចឆែកមើលពត៌មាននៅក្នុង Data ដូចជា Geometry, Load….

7) ក្រោយមកចុច Calculations Button



## 3. វិធីសាស្រ្តក្នុងការដាក់សរសៃដែកចូលក្នុងគ្រឿងបង្គុំ:

Autodesk Revit Structure **មិនមែនជាកម្មវិធីសំរាប់គណនាសរសៃដែកទេ តែវាអាចបញ្ចូលសរសៃដែកបានតាមរយៈ** Autodesk Extension manager – **Reinforcement** ។ **យើងអាចកំណត់ ចំនួន** Span, **ប្រភេទដែកកង, គំលាតដែកកង, ទំហំមុខកាត់របស់ដែក... មិនតែប៉ុណ្ណោះ ការបញ្ចូលសរសៃដែកចូលក្នុងគ្រឿងបង្គុំយើងអាចអនុវត្តន៏បានចំពោះ ធ្នឹម, សសរ, គ្រឹះដាច់, ជញ្ជាំងទប់ដី, កំរាលខណ្ឌ, ជញ្ជាំងខ័ណ្ឌ.....**។

Reinforcement



## ឧទាហរណ៍:

រូបខាងក្រោមនេះជាគ្រឿងបង្គុំដែលមានតែសសរ នឹង ធ្នឹមប៉ុណ្ណោះ ដោយយើងនឹងធ្វើការបញ្ចូលសរសៃដែកទៅក្នុងធ្នឹមមួយតាមរយៈ Reinforcement – Beams ។




- ចុចលើធ្នឹមដែលត្រូវបញ្ចូលសរសៃដែក
- Click Add-ins ( Ribbon )
- ជ្រើសយក Reinforcement ( menu ) - **Reinforcement of Beams**




- Click លើ stirrups ដើម្បីកែដែកកង, គំលាតដែកកង, មុខកាត់...
- សូមបំពេញដូចរូបខាងក្រោម



➤ Click លើ stirrups distribution




➤ ក្នុង Distribution Types ជ្រើសរើសយក 


➤ រួចធ្វើការកែប្រែដែកទៅតាមតួនាទីរៀងៗខ្លួន

➤ Click លើ Bars – main




➤ នៅក្នុង Lower bar ជ្រើសរើសមុខកាត់សរសៃដែកខាងក្រោម 22M

- នៅក្នុង Upper bar ជ្រើសរើសមុខកាត់សរសៃដែកខាងលើ 22M

L គឺជាប្រវែងសរុបរបស់ធ្នឹម

n ជាចំនួន Span យក n = 1

- Tick លើ Divide bars above supports
- Click on Additional top bars (menu)

ដោះ Tick លើ bar above the extreme left ប្រសិនបើយើងមិនប្រើដែកតំណខាងឆ្វេង

ដោះ Tick លើ bar above the extreme left ប្រសិនបើយើងមិនប្រើដែកតំណខាងស្តាំ




- Click on Additional bottom bars (menu)

ដោះ Tick លើ bar above the extreme left support ប្រសិនមិនប្រើដែកតំណនៅទំរខាងឆ្វេង

ដោះ Tick លើ bar above the extreme left support ប្រសិនមិនប្រើដែកតំណនៅទំរខាងស្តាំ

ដោះ Tick លើ span bar ប្រសិនមិនប្រើដែកនៅកណ្តាលធ្នឹមខាងក្រោម







## 4. វិធីសាស្ត្រក្នុងការបំលែងប្លង់ Model របស់ Revit ទៅជាប្លង់គណនា Robot

ប្រសិទ្ធិភាពប្លង់របស់ Revit Structure អាចធ្វើការបំលែងប្លង់ Design របស់ Revit

ទៅ Autodesk Robot Structural analysis បានយ៉ាងលឿនបំផុតតាមរយៈ Extension manager - Robot structure analysis ។ ការប្រើប្រាស់ Autodesk Revit Structure 2010 គឺអាចធ្វើការ Design នៅរាល់ប្រភេទអគារទាំងឡាយបានយ៉ាងល្អប្រណិត ដែលមានគូរអរដោនេ, មុខកាត់សសរ, ធ្នឹម, ជញ្ជាំង...ច្បាស់លាស់ ហើយអាចបញ្ជូនទៅ Robot ដើម្បីគណនារកសរសៃដែកថែមទៀតដូចឧទាហរណ៏ខាងក្រោមនេះ។



- Click លើ add-ins ( Ribbon )
- ជ្រើសរើសយក Robot Structural Analysis




- ជ្រើសរើសយក Intergration with robot structural analysis
- ក្រោយមកវាបង្ហាញផ្ទាំងដូចរូបខាងក្រោម




- Click OK Button ដើម្បីបន្ត
- ផ្ទាំង Send Option បានបង្ហាញ
- Tick លើ Execute model correction in robot
- នៅក្នុង Bar end release click “ Do not use Revit Setting ”
- Click OK




- Click យក Yes ដើម្បីមើលរបាយការណ៍បន្ថែម


Warning list
Messages
Analysis Integration Enabler - Send
2010-4-28 10:05:14 - Command execution started.
--> Stage execution time: 0 [seconds]
Assigning shared parameter file
--> Stage execution time: 2 [seconds]
Reading Elements
--> Levels: 5 instances registered
--> Stage execution time: 216 [seconds]
Close



# I. វិធីសាស្ត្របង្កើតប្លង់គ្រឿងបង្គុំអគារបេតុងអាម៉េកំពស់ ១៤ជាន់

## 1. ការបង្កើតកូអរដោនេ និង កំពស់របស់អគារ:

### a. វិធីសាស្ត្របង្កើតកូអរដោនេ:

- បើកដំណើរការកម្មវិធី Autodesk Revit Structure
- ចុចលើពាក្យ New
- នៅក្នុង Project Browser/View/Structural Plans ជ្រើសរើសយក ( Level 1 )
- ចុច Grid នៅក្នុង Home Ribbon
- គូសចំនួនកូអរដោនេដូចបង្ហាញនៅក្នុងរូបខាងក្រោម:




- ដើម្បីវាស់ប្រវែងបន្ទាត់កូអរដោនេ ត្រូវជ្រើសយក Aligned ក្នុង Annotate Ribbon

- ក្រោយមកធ្វើការប្តូរឈ្មោះលេខដែលមានក្នុងជួរឈរខាងលើ ( លេខ ទៅជា អក្សរ )

## b. វិធីសាស្ត្របង្កើតកំពស់តាមជាន់នីមួយៗ ( Elevation ):

- នៅក្នុង Project Browser/View/Elevation ជ្រើសរើសយក ( East )
- នៅក្នុង Home/Datum ជ្រើសយក Level
- ក្នុង Modify Place Level / Offset : 3000
- ចាប់ផ្តើមគូសចាប់ពីជាន់ទី ២ ទៅរហូតដល់ជាន់ទី 14



ក្រោយមកធ្វើការរៀបចំទិសទាំង 3 ផ្សេងទៀត




## 2. ការបង្កើតដោយជ្រើសរើសនិងការកំណត់មុខកាត់សសរៈ




- ជ្រើសរើស Structural Column នៅក្នុង Home / Structure
- វាយ Command **PP**
- ជ្រើសយកសសរបេតុងអាម៉េ M_Concrete-Rectangular Column (450 x 600mm)




- ចូល Edit Types ដើម្បីប្តូរឈ្មោះទៅ C1
- កំនត់កំពស់សសរ 3000 mm ( Depth )
- កំនត់តាមទីតាំងនិមួយៗរបស់សសរ




➢ យើងអាចធ្វើការដាក់រូមនៅទីតាំងរបស់សសរម្តងទាំងអស់ក្នុងករណីមុខកាត់ និង កំពស់របស់សសរប៉ុនគ្នា ដោយចុច At Grids



### 3. ការបង្កើតដោយជ្រើសរើសនិងការកំណត់មុខកាត់ធ្នឹមៈ

- ជ្រើសរើស Beam នៅក្នុង Home / Structure




- វាយ Command **PP**
- នៅផ្ទាំង Properties ជ្រើសរើសធ្នឹមឈ្មោះ M_Concrete-Rectangular Beam




- ចុចលើ Edit Types ដើម្បីប្ដូរមុខកាត់របស់ធ្នឹម




- ចុច Duplicate ដើម្បីបង្កើតធ្នឹមមួយទៀត
- ប្ដូរឈ្មោះ B1 និង ប្ដូរមុខកាត់ធ្នឹម ( b = 300 mm និង h = 500 mm )
- ករណីនេះយើងកំណត់មុខកាត់ធ្នឹមដូចគ្នាទាំងអស់
- ចុចលើ On Grids ហើយ Select កូអរដោនេទាំងអស់



## 4. ការបង្កើតកំរាលខ័ណ្ឌមានកំរាស់ 120 mm:

- ជ្រើសរើស Structural Floor នៅក្នុង Home / Structure
- ក្នុង Draw ជ្រើសរើស Boundary Line - Rectangal
- គូសភ្ជាប់ 2 ចំនុចនៅទីតាំងដែលមានកំរាលខ័ណ្ឌ
- ចុចលើសញ្ញា Tick ✓
- វាយ Command **PP**
- ចុចលើ edit types
- ក្នុង Construction – Structure សូមចុច edit
- ក្នុង Thickness ប្តូរកំរាស់មក 120 mm រួច OK –> OK
- ចុច Rename ដើម្បីប្តូរឈ្មោះទៅ S_120









ក្នុង View ( Ribbon ) ចុចលើ 3D View



5. <u>ការបង្កើតជញ្ជាំងបេតុងកំរាស់ 200 mm:</u>




- ជ្រើសរើស Structural Wall នៅក្នុង Home / Structure
- វាយ PP ដើម្បីជ្រើសរើសប្រភេទជញ្ជាំង និង កំរាស់
- ជ្រើសយក Basic Wall – Generic-200 mm
- ប្តូរទិន្នន័យដូចរូបខាងក្រោម




- គូសភ្ជាប់ពីសសរមួយទៅសសរមួយទៀត




6. <u>ការបង្កើតជណ្តើរ:</u>

- ជ្រើសរើស Stairs នៅក្នុង Home / Circulation
- នៅក្នុង Modify create Stair sketch / Draw ជ្រើសយក Run → Line
- គូសភ្ជាប់ចំនុចទី 1 ទៅចំនុចទី 2 ឯាកឆ្វេង រឺ ស្តាំ ( អាស្រ័យទីតាំងរបស់ជណ្តើរ )
- គូសភ្ជាប់ចំនុចទី 3 ទៅចំនុចទី 4
- សូមមើលរូបដូចខាងក្រោម




➢ ចុចលើសញ្ញា ✓



- ចូលក្នុងគំហើញ 3D View
- លុបបង្កាន់ដៃចោល
- ប្ដូរប្រភេទជណ្ដើរមកជា Monolithic Stair វិញ




7. <u>ការងារចោះប្រហោងជណ្ដើរលើកំរាលខ័ណ្ឌ:</u>

- ក្នុង Home/Opening ចុចលើ Shaft Opening
- ជ្រើសរើស Level 1 ដើម្បីបង្កើតប្រហោង




- ក្នុង Modify Create Shaft Opening Sketch ជ្រើសយក Boundary – Rectangular
- គូសភ្ជាប់ 2 ចំនុចជុំវិញទីតាំងរបស់ជណ្ដើរក្នុងប្លង់ចាត
- រួចចុចសញ្ញា ✓



## 8. ការងារចំលងគ្រឿងបង្គុំទៅជាន់ផ្សេងទៀត:

- ចុចលើ View ( Ribbon )
- ក្នុង Create ជ្រើសរើសយក 3D View
- Select យកគ្រឿងបង្គុំទាំងអស់
- ក្នុង Modify Multiselect ចុចលើ Clipboard- Copy
- ក្នុង Clipboard ដដែលសូមចុចលើ Aligned to select Level ដែលនៅក្នុង Paste
- Select ពីជាន់ទី 2 ដល់ជាន់ទី 14
- Ok






# II. វិធីសាស្ត្រក្នុងការដាក់បន្ទុកលើគ្រឿងបង្គុំ:

## 1. ការកំណត់បន្ទុករាយស្មើលើធ្នឹម:

- ជ្រើសរើស Level 2 ដើម្បីកំនត់បន្ទុក
- ត្រង់ជួរលេខ 6 ដោយមានជញ្ជាំងរៀបឥដ្ឋ នោះយើងកំនត់ដូចតទៅ




ទំងន់មាឌរបស់ឥដ្ឋ = 1800 kg/m$^3$ = 18 kN/m$^3$

- ក្នុង Analysis ជ្រើសរើស Load Case ដើម្បីត្រួតពិនិត្យមើលប្រភេទរបស់បន្ទុក

*ប្រភេទបន្ទុក:

- Dead Load = បន្ទុកថេរ
- Live Load = បន្ទុកអថេរ
- Wind Load = បន្ទុកខ្យល់
- Snow Load = បន្ទុកព្រិលធ្លាក់

- Roof Load = បន្ទុកដំបូល
- Accidental Load = បន្ទុកគ្រោះថ្នាក់
- Temperature Load = បន្ទុកកើតឡើងដោយសារសីតុណ្ហភាព, កំដៅ, ភាពត្រជាក់...
- Seismic Load = បន្ទុករញ្ជួយផែនដី




➢ ចុច OK

➢ ចុចលើ Loads ដើម្បីកំណត់បន្ទុករាយស្មើរបស់ជញ្ជាំង

➢ នៅក្នុង Modify Place Loads ជ្រើសយក Line Load

➢ វាយ Command **PP** កំណត់ Properties

➢ ក្នុង Properties កំណត់ពត៌មានដូចខាងក្រោម

| Structural Analysis | |
|---|---|
| Load Case | DL1 (1) |
| Orient to | Workplane |
| Fx1 | 0.00 kN/m |
| Fy 1 | 0.00 kN/m |
| Fz 1 | - 9.00kN/m |
| Uniform Load | Tick ✓ |
| Projected load | Tick ✓ |

- គូសភ្ជាប់ពីអ័ក្សសសរមួយទៅអ័ក្សសសរមួយទៀត




**2. ការកំណត់ផ្ទៃលើកំរាលខ័ណ្ឌ :**

- ជ្រើសរើស Level 1 ដើម្បីកំនត់បន្ទុកជាផ្ទៃ
- ចុចលើ Loads ដើម្បីកំណត់បន្ទុកផ្ទៃ
- នៅក្នុង Modify Place Loads ជ្រើសយក Area Load - rectangular
- គូសភ្ជាប់ 2 ចំនុចលើផ្ទៃដែលមានបន្ទុក
- ត្រួតពិនិត្យក្នុងប្លង់ 3D
- ចុចលើ បន្ទុកផ្ទៃដែលបានកំណត់រួចប្តូរទិន្នន័យរបស់បន្ទុកនោះ



ទំងន់មាឌរបស់ឥដ្ឋ = 2200 kg/m$^3$ = 22 kN/m$^3$

ទំងន់មាឌឡប់ខ្សែរ ( បាយអរ ) = 2200 kg/m$^3$ = 22 kN/m$^3$

* Dead Load នៃការ៉ូ = 22 x 0.015 = 0.33 kN/m$^2$

* Dead Load នៃឡប់ខ្សែរ = 22 x 0.022 = 0.484 kN/m$^2$

| Structural Analysis of Tiles | |
|---|---|
| Load Case | DL1 (1) |
| Orient to | Workplane |
| Fx1 | 0.00 kN/m$^2$ |
| Fy 1 | 0.00 kN/m$^2$ |
| Fz 1 | - 0.33 kN/m$^2$ |
| Uniform Load | Tick ✓ |
| Projected load | Tick ✓ |
| **Structural Analysis of Mortar** | |
| Load Case | DL1 (1) |
| Orient to | Workplane |
| Fx1 | 0.00 kN/m$^2$ |
| Fy 1 | 0.00 kN/m$^2$ |
| Fz 1 | - 0.484 kN/m$^2$ |
| Uniform Load | Tick ✓ |
| Projected load | Tick ✓ |

# III. វិធីសាស្ត្រក្នុងការកំណត់ប្រភេទទំរ ( Support ) អោយគ្រឿងបង្គុំ:

➢ ចុចលើ Analyze → Boundary Condition




Point = ទំរជាចំនុច ( សំរាប់សសរ... )

Line = ទំរជាបន្ទាត់ ( សំរាប់ជញ្ជាំង, ធ្នឹម...)

Area = ទំរជាផ្ទៃ ( សំរាប់កំរាលខ័ណ្ឌគ្រឹះ...)



កំណត់ប្រភេទទំរ ( Fixed, Pinned)

